# ខ្មែរប៉ុស្តិ៍
THE KHMER POST
ISSUE 42 August 21th - September 03rd 2009



## សមាគមព្រឹទ្ធាចារ្យដល់ណាហើយ

ដោយ : ពិន សំខុន


លោក សុរិន ជូ

•••កាលពីលើកមុនយើងបានជម្រាបលោកអ្នកអាន អំពីវិបត្តិនាំឱ្យមានការថយដំណើរការណ៍សមាគមព្រឹទ្ធាចារ្យខ្មែរ-អាមេរិកាំង អស់រយៈកាលជិត១ឆ្នាំមកហើយ ទោះបីជាជនចាស់ជរាខ្មែរ ត្រូវការសេវាពីសមាគមមួយនេះយ៉ាងខ្លាំងក្លាយ៉ាងណាក៏ដោយ ។ ដំណើររាំងស្ទះ គឺបណ្ដាលមកពីសមាគមមួយ មានគណកម្មាធិការនាយកដល់ទៅពីរ ។

ថ្ងៃទី៣០ ខែឧសភា ២០០៩ សមាគមព្រឹទ្ធាចារ្យខ្មែរ បានអញ្ជើញសមាជិកប្រមាណ ៥០នាក់ មករួមប្រជុំ ដើម្បីជ្រើសរើសគណកម្មាធិការនាយកថ្មី ជំនួសគណកម្មាធិការចាស់ ដែលមិនទាន់អស់អាណត្តិ ដឹកនាំដោយលោក សុរិន ជូ អមដោយសមាជិកថ្នាក់ដឹកនាំកំពូលចំនួន ៦នាក់ទៀត ។ បោះឆ្នោតរួចប្រធានបានទៅលោក ម៉ៅ ម៉ន ទើបមានប្រតិកម្មពីគណកម្មាធិការចាស់ថា ការបោះឆ្នោតចុងក្រោយនេះ គឺជា " រដ្ឋប្រហារ " របស់នាយកវណ្ណា ងួន ហើយមិនទទួលស្គាល់អ្នកថ្មីនោះទេ ។ តទៅទំព័រទី ២០

## ការប្រឡងបញ្ចប់ High School ជិតជាមរឿងអាស្រូវ

ភ្នំពេញ, ខ្មែរប៉ុស្តិ៍ : ឃុត សីហា

•••ការប្រឡងបញ្ចប់ការសិក្សារបស់សិស្ស នៅ High School នៅឆ្នាំណាក៏មានបាតុភាពមិនអាចចៀសរួចបានឡើយ ។ បេក្ខជនទៅប្រឡងគ្រប់រូបបានទិញប្រើយ៉ុងដាក់តាមខ្លួន ដើម្បីទុកចម្លងនៅក្នុងថ្នាក់ និងរៃអង្គាសលុយកាក់ឱ្យគ្រូជាអនុរក្សកុំឱ្យចាប់ប្រើយ៉ុងរបស់ខ្លួន ។


បេក្ខជនរោមទិញប្រើយ៉ុង

ចំណែកអនុរក្សមួយចំនួនបានប្រើតួនាទីគំរាមសិស្សយកលុយដាក់ហោប៉ៅជាថ្នូរនឹងការជួយមើលផ្លូវ និងទុកឱកាសឱ្យពួកគេបានចម្លងឯកសារ ។ រីឯអ្នកកាន់ឯកសារវិញ្ញាសាខ្លះបានធ្វើឱ្យបែកធ្លាយធ្វើឱ្យអាជីវករ និងសិស្សនាំគ្នាដាក់លក់ និងទិញព្រោងព្រាតដូចនៅផ្សារត្រីអីចឹង ។

យុវសិស្ស ហឿន ស៊ីវហេង ប្រឡងនៅមណ្ឌលបាក់ទូក និយាយថា វិញ្ញាសានៅឆ្នាំនេះ ពិបាកខ្លាំងណាស់ ហើយគ្រូអនុរក្សតឹងតែង គាត់បានប្រមូលប្រើយ៉ុងស្ទើរអស់ ប៉ុន្តែនៅពេលពួកយើងខ្ញុំរៃអង្គាសលុយកាក់ឱ្យ គឺគាត់ក៏ផ្ដល់ឱកាសឱ្យចម្លងដោយសេរី ។

ហឿន ស៊ីវហេង បានបន្តថា អ្នកប្រឡង បើមិនប្រមូលលុយឱ្យគ្រូទេ គឺពិបាកក្នុងការដណ្ដើមយកជ័យជំនះខ្លាំងណាស់ ពួកយើងចង់បានសញ្ញាបត្រ តទៅទំព័រទី ១៦

## Amnesty Stars Lettrs Campaign For Boeng Kak

BY CHHORN CHANSY AND CHRISTI HANG
THE CAMBODIA DAILY

Human rights group Amnesty International has issued an "urgent call" to supporters around the world to help prevent the scheduled eviction of Village 2 and 4 at Phnom Penh´s Boeng Kak lake, with is scheduled for monday .

According to the appeal, Amnesty want the eviction of the estimated 160 families from the two villages halted , and Phnom Penh Municipal officials to also reconsider the proposed relocatoin site, Damnak Trayoeng , because it has "no adequate shelter, water, electricity, sanitation, sewerage, health care or job opportunities".

"Please write immediately in English, Khmer or your own language," Amnesty said in its appeal, noting that the letters should be sent to Phnom Penh Governor Kep Chuktema and Deputy Prime Minister Sar Kheng, with copies also send to foreign diplomatic representatives in Cambodia .


Charles Fox/The Cambodai Daily
Holding image of Prime Minister Hun Sen and his wife, Bun Rany, Boeng Kak Lake Protesters gather outside the Phnom Penh Governor´s office on Friday seeking help to avert their imminent eviction as the lake is filled with ahead of a massive private building project.

"Amnesty acts and asks its members to take action when it receives credible and reliable information that servious human rights violations have occurred or that individuals and communities are at imminent risk, as in this case," Janice Beanland, a campaigner with Amneysty´s Southeast Asia team, wrote in an email on Friday .

"Based on average figures, we are hopeful that the appeal for families living around Boeng Kak Lake will generate upward of 5,000 mesages to the Phnom Penh governor, calling on the authorities not to forcibly evict the affected people and to review the resettlement process," Ms Beanland wrote .

Governor Chuktema declined to comment on Friday .

( Continued on page 13 )

# ផលិតកម្មបិទទ្វារជាបន្តបន្ទាប់ដោយស្នាដៃជនទុច្ចរិត

**+ជម្ងឺភាពយន្តឆ្លងដល់ការផលិតចម្រៀងស្លាប់ជាបន្តបន្ទាប់ :**

**Long beach, ខ្មែរប៉ុស្តិ៍ : មាជ សុវណ្ណារ៉ា**


លោក ហៃ្វ សំអាង


អ្នកស្រី គង់ សុជាតិ


អ្នកស្រី ស៊ូ វ៉ាន់នី


លោក គីម ហេង


លោក ស៊ុំ សារឿន

ម្ចាស់ផលិតកម្មនានាជាច្រើននាក់បានត្អូញត្អែរពីការរកស៊ីខាតបង់ដោយបានសម្តែងនូវការព្រួយបារម្ភពីអាជីពរបស់ខ្លួន អាចនឹងឈានទៅរកការដួលរលំបិទទ្វារជាបន្តបន្ទាប់ ដោយពួកគេបានថ្កោលទោសចំពោះពួកជនទុច្ចរិត ដែលលួចចម្លងស្នាដៃដើមយកទៅប្រកបអាជីវកម្មដើម្បីប្រយោជន៍ផ្ទាល់ខ្លួន ក្រោមកម្លាំងញើសឈាមអ្នកដទៃដោយឥតអៀនខ្មាសនោះថា កំពុង តែបំផ្លាញវប្បធម៌ សិល្បៈ ឱ្យបាត់បង់ ឬឱ្យដើរ ថយក្រោយហើយ ។

ម្ចាស់ក្រុមហ៊ុនមយូរា លោក ឆាន ឈួរ បានបញ្ជាក់ប្រាប់ខ្មែរប៉ុស្តិ៍ថា "ពីដើមមនុស្សមើលតិចតែលក់បានច្រើន ឥឡូវមនុស្សមើលច្រើនមែនទែនតែលក់បានតិចជាងមុន ព្រោះអ្នកមើលទិញរបស់ចោរដែលធ្វើឱ្យផលិតកម្មខ្ញុំស្ថិតនៅក្នុងភាពគ្រោះថ្នាក់" ។

ម្ចាស់ក្រុមហ៊ុន S.M លោក ម៉ៃ សាម៉េត ត្អូញត្អែរថា ក្រុមហ៊ុនលោកជួបការលំបាក ព្រោះចំណាយលុយផលិតអស់ច្រើន ពេលលក់បានចំណូលតិចតួច ឬខាតបង់ទៅទៀតក្នុងប៉ុន្មានឆ្នាំចុងក្រោយនេះ ព្រោះតែពួកចោរលួចចម្លង (Copy) ។ ដូច្នេះបើបងប្អូនគាំទ្រពួកចោរទិញរបស់ចោរ ក្រុមហ៊ុនផលិតកុន ខារ៉ាអូខេ បទចម្រៀងក្តីត្រូវដួលរលំឈានទៅរកការបិទទ្វារជាបន្តបន្ទាប់ ។

ម្ចាស់ផលិតកម្មនីមួយៗបានប្រឹងប្រែងយ៉ាងអស់ពីសមត្ថភាពក្នុងការបង្កើតផលិតកម្មរបស់ខ្លួន ព្រោះផលិតកម្មនីមួយៗត្រូវចំណាយលុយអស់ច្រើនណាស់ទើបបង្កើត ។ ម្ចាស់ផលិតកម្មនោះបានប្រមែប្រមូលលុយកាក់ ដែលខ្លួនសន្សំទុកជាច្រើនឆ្នាំមកហើយ ថែមទាំងបានលក់អស់នូវគ្រឿងអលង្ការដែលខ្លួន និងប្រពន្ធកូនតែងតែប្រើប្រាស់រាល់ថ្ងៃ ដោយក្តីស្រឡាញ់ និងការស្តាយសង្ស៊ឹមថា ថ្ងៃណាមួយពេលផលិតកម្មរបស់ខ្លួនមានដំណើរការល្អ គឺបានផលកម្រៃ និងទិញឱ្យប្រពន្ធកូនវិញ ។ អ្នកខ្លះបានទៅចងការលុយគេ ឬលេងតុងទីនពីរបីក្បាលយកមកផ្សែផ្សំយ៉ាងត្រដាបត្រដួសដើម្បីបង្កើតផលិតកម្មមួយដែលខ្លួន ស្រឡាញ់ដោយសង្ឃឹមថា នឹងបានជោគជ័យ និងបានកែប្រែជីវភាពគ្រួសារឱ្យបានធូរធារ ដូចអ្នកជំនួញដទៃ (Business) ។

ជួនកាលចាប់ផ្តើមធ្វើទៅលក់មិនដាច់ គេមិនទិញ ផលិតកម្មនោះត្រូវដួលរលំទៅវិញ ម្ចាស់ផលិតកម្មត្រូវវង្វេងវង្វាន់ ព្រោះជំពាក់លុយគេរត់ការប្រាក់ តទៅទំព័រទី ០៩

# ទស្សនៈវិស័យ : យួន និងសៀមពុំដែលទុកជាតិគេជាខ្មាំងសត្រូវសោះឡើយ

**ដោយ : ម៉ម យឹន**

•••ប្រធានបទនៃទស្សនៈវិស័យខាងលើនេះ គឺពិតជាគោលគំនិតមូលដ្ឋាននៃជនជាតិយួនវៀតណាម និងជនជាតិសៀម ថៃ គេបានចងចាំជាប់ជានិច្ច ក្នុងបុព្វហេតុបណ្តុះបណ្តាលជាតិសាសន៍គេឱ្យមានឥទ្ធិពលខ្លាំងពូកែទៅលើជាតិសាសន៍ដទៃ ។

ជនជាតិ យួន និងជនជាតិសៀម ជាតិទាំងពីរនេះ សុទ្ធតែមានដើមកំណើតចេញមកពីប្រទេសចិនដូចគ្នា ដោយមុនដំបូងជនជាតិយួន (JUAN) បានរត់ចេញពីប្រទេសចិនភាគខាងត្បូង ដោយសារតែជាតិយួននេះ ជាមនុស្សប្រព្រឹត្តអំពើអាក្រក់ អំពើឧក្រិដ្ឋ ប្រឆាំងនឹងច្បាប់និតិរដ្ឋចិន ហើយត្រូវរដ្ឋអំណាចចិន ស្វែងរកចាប់ខ្លួន ដើម្បីផ្តន្ទាទោស ម្ល៉ោះហើយបណ្តាលឱ្យជនជាតិយួននេះ នាំគ្នារត់ចេញមកពួនលាក់ខ្លួននៅក្នុងតំបន់ដាច់ស្រយ៉ាលមួយដែលគេឱ្យឈ្មោះថា ដែនតុងកឹង ។

ដែនតុងកឹងនេះ ត្រូវជនជាតិ ដៃវៀត យួន លប់ឈ្មោះចោលហើយ នៅពេលដែលយួនបានរឹបអូសយកទឹកដីចម្ប៉ា (ចាម) នៅមុនសតវត្សទី១៦ រួចហើយបន្តបញ្ជូនជនជាតិយួនបន្តិចម្តងៗ ឱ្យមករឹបអូសយកដែនដីកម្ពុជាក្រោមចាប់តាំងពីដើមសតវត្សទី១៦នោះមកទៀតដែរ ។

ជនជាតិយួន បានកែឈ្មោះថ្មីថា ប្រទេសវៀតណាមរហូតមកដល់សព្វថ្ងៃនេះ ថែមទាំងយួនបានបង្កើតផែនការពង្រីកទឹកដី និងឥទ្ធិពលរបស់ខ្លួន ឥតមានពេលណាបោះបង់ម្តងណាឡើយ ទោះបីជនជាតិយួន ជាមេដឹកនាំមានប្រកាន់មនោគមវិជ្ជា ជារបបគ្រប់គ្រងប្រទេសនៅក្នុងលក្ខណៈជាសេរី ឬជាកុម្មុយនីស្តផ្តាច់ការយ៉ាងណាក៏ដោយ គឺមានចិត្តគំនិត និងប្តេជ្ញាតាំងចិត្ត គោលជំហរតែមួយដូចគ្នា ពុំដែលយកជនជាតិជាខ្មាំងសត្រូវស្លាប់រស់ និងគ្នាម្តងណាឡើយ ។

ចំណែកជនជាតិសៀម (SIAM) នៅពេលដែលមានទឹកដីរស់នៅជាប់គ្នាជាមួយប្រទេសចិន សៀមត្រូវរងទុក្ខលំបាកវេទនា ដោយសារមានជីវភាពរស់នៅជួបប្រទះនូវការខ្វះខាតធ្ងន់ធ្ងរហួសក៏រិត ធ្វើឱ្យទ្រាំទ្រលែងបាន ជាពិសេសសៀមជាជនជាតិព្រៃផ្សៃរបស់សង្គមចិន ក្នុងចំណោមជនជាតិផ្សេងៗទៀត ដូចជា ជាតិជិនជាតិកាជិន ជាតិការ៉េន ជាតិម៉េវ ។ល។ សៀមបានចេញឈ្មោះជាផ្លូវការ ចាប់តាំងពីសតវត្សទី៦ ដោយចិនចាត់ទុកជាជនជាតិព្រៃផ្សៃរបស់សង្គមចិន ដែលមានទីតាំងនៅខាងត្បូងខេត្តយ៉ង់សេ ហើយមានជាប់លាប់រហូតមកដល់សព្វថ្ងៃនេះ ។ នៅសតវត្សទី៨ សៀម បានបង្កើតរាជាណាចក្រ ណានចៅ មានរាជធានីឈ្មោះ យ៉ាលី ស្ថិតនៅចន្លោះជួរភ្នំ យ៉ាណ្ណាមដែលជានគរចំរុះប្រទេសចិន ។

ជនជាតិសៀម ក្រោយពីបានរំកិលខ្លួនបន្តិចម្តងៗ ចេញពីនគរ ណានចៅ មកដល់សតវត្សទី១៣ សៀមបានចាប់ចុះរាតត្បាតមកផ្នែកខាងជើងនៃរាជាណាចក្រខ្មែរ នៅភូមិភាគសុខោទ័យដែលពេលនោះ ក្សត្រប្រទេសសៀម រស់នៅក្រោមអធិរាជភាពរបស់ស្តេចខ្មែរ ។

ជនជាតិសៀម មានមហិច្ឆតាលោភលន់ខ្លាំងណាស់ បានប្រើគ្រប់យុទ្ធវិធី ដើម្បីកំចាត់ទេសាភិបាលខ្មែរ ដោយលបសម្លាប់ចោល រួចហើយតែងតាំងស្តេចសៀម នៅសុខោទ័យហើយកែឈ្មោះ សុខោទ័យ ទៅជាភាសាសៀមថា សុខោថៃ រហូតមក ។

ប្រវត្តិសាស្ត្រខ្មែរ បានចែងទុកមកយ៉ាងហូរហែរ ស្តីអំពីសង្គ្រាមរវាងខ្មែរ និងសៀម ដែលកើតឡើងដោយសារស្តេចខ្មែរដណ្តើមរាជគ្នាផង និងដោយសារកលល្បិចរបស់ជនជាតិសៀមគេត្រូវតែបង្កើតសង្គ្រាម ធ្វើឱ្យជនជាតិខ្មែរ ធ្លាក់ខ្សោយគ្រប់វិស័យ រួចហើយសៀមមានឱកាសពង្រីកទឹកដី និងពង្រឹងគោលជំហរគ្រប់គ្រងត្រួតត្រាទឹកដី និងជនជាតិខ្មែរ ដែលសៀមរឹបអូសយកបាន ។

ពីសតវត្សមួយទៅសតវត្សមួយ ចាប់តាំងពីក្រោយសម័យអង្គរមក ជនជាតិយួន និងសៀមជាជាតិសាសន៍ពីនៅតាបប្រទេសខ្មែរ ។ ជាតិយួននៅភាគខាងកើត និងជាតិសៀមនៅភាគខាងលិច ប្រៀបដូចជាមាត់ដង្កាប់ពីរកំពុងតាបរិតលើវត្ថុមួយឱ្យបានជាប់កុំឱ្យរបូតបានឡើយ ។

ការបរិយាយយ៉ាងសង្ខេបស្តីអំពីជនជាតិយួន និងសៀមនេះ គឺគ្រាន់តែចង់ពន្យល់ណែនាំឱ្យបានយល់ដឹងខ្លះ អំពីលក្ខណៈសម្បត្តិ និងចេតនារម្មណ៍នៃជនជាតិទាំងពីរ ដែលគេតែងតែប្រកាន់យកជាប្រចាំ ទោះបីនៅក្នុងសតវត្សណាក៏ដោយ ក៏ជាតិសាសន៍យួន និងសៀមនេះពុំដែលយកជនជាតិគេជាខ្មាំងសត្រូវស្លាប់រស់ជាមួយគ្នាសោះឡើយ ដូចមានព្រឹត្តិការណ៍ជាតួយ៉ាងពីរ ជាភស្តុតាងស្រាប់ដូចតទៅ :

**១-** នៅប្រទេសយួន វៀតណាម នៅក្នុងឆ្នាំ១៩៧៥ កម្លាំងទ័ពបក្សកុម្មុយនីស្តយួន យៀក-មិញ យៀកកុង បានឈ្នះសង្គ្រាមរំដោះដែនដីយួនខាងត្បូង យួនពុំបានសម្លាប់ជាតិយួន ឱ្យស្លាប់ឱ្យរាប់លាននាក់ ដូចនៅប្រទេសខ្មែរនោះទេ ។

នៅប្រទេសសៀមថៃ កន្លងមកជាច្រើនឆ្នាំហើយ បានកើតវិបត្តិនយោបាយយ៉ាងធ្ងន់ធ្ងរ ដោយសារមានរដ្ឋប្រហារពីកងទ័ពជាតិថៃផង មានការប្រជុំមហាបាតុកម្មមហាជនរាប់ឆ្នាំ ទាំងយប់ ទាំងថ្ងៃ រហូតធ្វើឱ្យនាយករដ្ឋមន្ត្រីជាច្រើនរូបត្រូវធ្លាក់ពីអំណាច និងមន្ត្រីសំខាន់ៗត្រូវជាប់គុក និងបណ្តេញចេញពីតំណែងផង ។

ទោះបីជាស្ថានភាពវិបត្តិនយោបាយបានធ្លាក់ចុះដុនដាបរហូតមកដល់សព្វថ្ងៃក៏ដោយ ក៏នៅក្នុងប្រទេសសៀម ពុំទាន់ឃើញមេដឹកនាំណា ប្រើអំណាចផ្តាច់ការ ដោយហឹង្សា បាញ់សម្លាប់ក្រុមអ្នកប្រឆាំងទាំងនោះ ដោយព្រៃផ្សៃសោះឡើយ ។ ខុសគ្នានៅក្នុងប្រទេសខ្មែរ មេដឹកនាំខ្មែរ ដែលមានឋានៈជានាយករដ្ឋមន្ត្រីបានប្រើអំណាចផ្តាច់ការយ៉ាងកាចសាហាវព្រៃផ្សៃបំផុត ។

មេដឹកនាំ និងមន្ត្រីខ្មែរ មើលមិនឃើញហើយពុំយល់ដឹងទាល់តែសោះ ប្រៀបដូចជាមនុស្សទាំងនេះ ចាប់ផ្តើមមានកំណើតជាជាតិខ្មែរ មានតែរូបកាយខ្លួនទេ ខួរក្បាល ទេវតាបានយកខួរក្បាលជាតិដទៃមកបញ្ចូលឱ្យទៅវិញ គឺខួរក្បាលយួន ឬសៀម ទើបបណ្តាលឱ្យមេដឹកនាំខ្មែរ និងមន្ត្រីខ្មែរ ត្រូវតែយកជាតិខ្មែរដែលស្រឡាញ់ជាតិពិតប្រាកដទាំងអស់ ទុកជាខ្មាំងសត្រូវស្លាប់រស់របស់ខ្លួន ហើយត្រូវតែកំចាត់កំចាយ រហូតដល់សម្លាប់ចោលឱ្យដាច់ពូជសាសន៍ខ្មែរតែម្តង ។

ដរាបណាមេដឹកនាំ និងមន្ត្រីខ្មែរសម័យនេះ នៅតែប្រកាន់អាកប្បកិរិយាជាមេដឹកនាំ យកជនជាតិខ្លួនឯងជាខ្មាំងសត្រូវស្លាប់រស់ដរាបនោះប្រទេស និងជនជាតិខ្មែរជំនាន់ក្រោយប្រាកដជាគេចមិនរួចពីការក្លាយទៅជាជនជាតិភាគតិច ហើយក្លាយទៅជាខ្ញុំកញ្ជះជនជាតិយួន និងសៀម ដែលធ្លាប់បានធ្វើ និងកំពុងធ្វើសព្វថ្ងៃនេះ ជាបណ្តើរៗតទៅរហូតដល់បានសម្រេចជោគជ័យជាស្ថាពរ ៕



## មាតិការឿង

# វិភាគនយោបាយ គណបក្សប្រឆាំងប្រឹងប្រែងចងសម្ព័ន្ធភាព



**ដោយ : ពិន សំខុន**

❖❖❖នៅក្នុងវេបសាយរបស់គណបក្ស សម រង្ស៊ី គេអាចមើលឃើញ រូបថតលោក កឹម សុខា និង លោក សម រង្ស៊ី ញញឹម ហើយរលាក់ដៃគ្នា ដែលយើងភ្ជាប់ជាមួយនេះ ។ សញ្ញានេះ បញ្ជាក់ពីការពេញចិត្ត ពេញថ្លើមនៃចំណងសម្ព័ន្ធភាព រវាងគណបក្សប្រឆាំងដ៏ធំទាំងពីរនេះ ។

រីឯគណបក្សសិទ្ធិមនុស្សវិញ សេចក្តីថ្លែងការណ៍ របស់គណបក្សមួយនេះ បានផ្សព្វផ្សាយថា :

...គាំទ្រការផ្តួចផ្តើម និងជំរុញឱ្យមានការរួបរួមរវាងគណបក្សសិទ្ធិមនុស្ស និងគណបក្ស សម រង្ស៊ី ហើយលើកទឹកចិត្តឱ្យមានការរួបរួម ជាគណបក្សនយោបាយ ឬអ្នកនយោបាយផ្សេងទៀត ដែលមាននិន្នាការជាតិនិយម និង ប្រជាធិបតេយ្យសេរីនិយម ដោយឈរលើ អនុសាសន៍ពាច់នុចដូចតទៅ :

**ក.** បង្កើតគណបក្សថ្មីមួយរួមគ្នា ដែលមានឈ្មោះថ្មី

**ខ.** គណបក្សថ្មីមានរចនាសម្ព័ន្ធប្រជាធិបតេយ្យផ្ទៃក្នុងបក្ស ដែលរាល់ការសម្រេចគោលជំហរនយោបាយ និង សមាសភាពថ្នាក់ដឹកនាំរបស់គណបក្ស ត្រូវមានការពិគ្រោះ និងការសម្រេចចិត្តរួមគ្នា

**គ.** ប្រធានគណបក្សកំណត់អាណត្តិយ៉ាងយូរ២អាណត្តិ (១០ឆ្នាំ) អនុសាសន៍នេះ ប្រកាសប្រគល់ជូនសិទ្ធិថ្នាក់ដឹកនាំកំពូលរបស់គណបក្សសិទ្ធិមនុស្សលើកយកទៅពិភាក្សា និងសម្របសម្រួលជាមួយភាគីគណបក្ស ឬអ្នកនយោបាយដែលចូលរួម ។

ជំរុញ និងពន្លឿនឱ្យមានការសម្រេចជាគោលការណ៍ជាក់លាក់អំពីរូបភាព លក្ខណៈបញ្ចូលគ្នារវាងគណបក្សសិទ្ធិមនុស្ស និងគណបក្ស សម រង្ស៊ី ឱ្យបានឆាប់រហ័សមុនបំណាច់ឆ្នាំ២០០៩នេះ បើអាចធ្វើទៅបាន ។ ក៏ប៉ុន្តែការបង្កើតគណបក្សថ្មីតាមគោលការណ៍សម្រេចខាងលើនោះអាចធ្វើនៅពេលក្រោយតាមពេលវេលាចាំបាច់ក៏បាន ។

នៅលើសេចក្តីសម្រេចចិត្តរបស់គណបក្សទាំងពីរដែលសំខាន់អាចនឹងផ្តល់ការប្តូរទិសដៅនយោបាយរបស់ប្រទេសកម្ពុជាទៅបាននោះ ខ្ញុំសូមធ្វើការវិភាគដូចតទៅ :

**១-ការប្តូរផ្តាច់ :** គណបក្សសិទ្ធិមនុស្សបង្ហាញនូវជំហរយ៉ាងក្លាហានរបស់ខ្លួននៅលើលក្ខណៈជាមូលដ្ឋានពីរ គឺ "និន្នាការជាតិនិយម"និង"លទ្ធិប្រជាធិបតេយ្យសេរីនិយម" ។ ហើយនៅលើមូលដ្ឋាននេះ គណបក្សសិទ្ធិមនុស្សមិនខ្លាចនឹងបំបែកខ្លួនប្តូរឈ្មោះបក្សទៅចូលនឹងគណបក្សផ្សេងដែលមានមូលដ្ឋានដូចគ្នានេះទេ រីឯអាណត្តិរបស់ប្រធានបក្សវិញទោះជាមានប្រជាប្រិយភាពប៉ុណ្ណាក៏ដោយ ក៏ត្រូវតែកំណត់ឱ្យត្រឹមតែពីរអាណត្តិតែប៉ុណ្ណោះដែរ ។ លក្ខខ័ណ្ឌនេះអាចនឹងធ្វើឱ្យគណបក្សសិទ្ធិមនុស្សអាចរលំរលាយបានយ៉ាងងាយស្រួលប្រសិនបើជំហរនៃថ្នាក់ដឹកនាំសំខាន់មិនរឹងមាំទេនោះ ដូច្នេះគណបក្សសិទ្ធិមនុស្សត្រូវការពេលវេលា ដើម្បីជំនឿរបស់ខ្លួន ។

ផ្ទុយទៅវិញគណបក្ស សម រង្ស៊ី ហាក់ដូចជាបង្ហាញនូវការរារែកក្នុងការចងសម្ព័ន្ធភាពជាមួយគណបក្សសិទ្ធិមនុស្ស ព្រោះមិនបានបង្ហាញទស្សនៈពិតប្រាកដថា តើរូបមន្តណាមួយដែលអាចធ្វើឱ្យគណបក្សទាំងពីរបញ្ចូលគ្នាបាន ។ ចាប់តាំងពីគណបក្ស "ជាតិខ្មែរ" នាឆ្នាំ ១៩៩៤ រហូតមកដល់គណបក្ស សម រង្ស៊ី គណបក្សមួយនេះ តែងតែបង្ហាញសកម្មភាពដ៏រឹងមាំរបស់ខ្លួនថា គណបក្សជាតិនិយម ស្រឡាញ់ការប្តូរនយោបាយប្រទេសឱ្យទៅជាប្រទេសដែលគ្រប់គ្រងដោយលទ្ធិប្រជាធិបតេយ្យឥតផ្លាស់ប្តូរ រហូតដល់មានការឆ្លងកាត់ស្ថានភាពគ្រោះថ្នាក់ដល់ជីវិតច្រើនលើកច្រើនសារ ដើម្បីជំនឿរបស់ខ្លួនរាប់មិនអស់ ។

នៅមានគណបក្សពីរផ្សេងទៀត មិនអាចបោះបង់ការគ្រប់គ្រងពីអតីតព្រះមហាក្សត្របានគឺ គណបក្សហ៊្វុនស៊ិនប៉ិច និងគណបក្ស នរោត្តម រណឫទ្ធិ ។ គណបក្សទាំងពីរនេះ អាចនឹងមកចូលរួមជាមួយនឹងសម្ព័ន្ធភាពអ្នកប្រជាធិបតេយ្យនៅពេលខាងមុខ ក៏ប៉ុន្តែមានអតីតកាលធ្លាប់ជួយពង្រឹងជំហរអំណាចសម្ព័ន្ធភាពគណបក្សប្រជាជន និងអតីតព្រះមហាក្សត្រជាប្រចាំ ដែលហេតុធ្វើឱ្យគណបក្ស សម រង្ស៊ី (ពេលនេះតែម្នាក់ឯង) ទទួលរងគ្រោះរាល់ពេលគណបក្សហ៊្វុនស៊ិនប៉ិច (ពេលនោះទ្រង់នរោត្តម រណឫទ្ធិជាអ្នកដឹកនាំ) ដកខ្លួនថយពីការប្រយុទ្ធប្រឆាំងនឹងអំណាចរដ្ឋាភិបាលគណបក្សប្រជាជនម្តងៗ ។ គណបក្សពីរក្រោយនោះ មានការប្តូរផ្តាច់យ៉ាងជាក់ច្បាស់មួយ គឺចូលរួមពង្រឹងអំណាចរដ្ឋាភិបាលបច្ចុប្បន្ន ឬពេលក្រោយឱ្យទាល់តែបាន ។

**២-បច្ចេកទេស ដើម្បីចងសម្ព័ន្ធ :** ពលរដ្ឋខ្មែរជាច្រើនធុញទ្រាន់នឹងដំណើរយឺតៗនៃការទប់ស្កាត់ដំណើរផ្តាច់ការនៃនយោបាយនៅកម្ពុជា ដូច្នេះធ្វើឱ្យអ្នកខ្លះក៏នៅប្រឹងប្រែងទាំងអស់សង្ឃឹម ហើយខ្លះទៀតក៏បោះបង់ការតស៊ូថែមទៀត ។ លោក កឹម សុខា ប្រធានគណបក្សសិទ្ធិមនុស្សបច្ចុប្បន្នធ្លាប់មានកេរ្តិ៍ឈ្មោះឥតចុះថយ តាំងតែពីឆ្នាំ ១៩៩៣ ដូចគ្នានឹងលោក សម រង្ស៊ី ដែរ ក៏ប៉ុន្តែខុសគ្នាត្រង់លោក សម រង្ស៊ី ទទួលខុសត្រូវជាប្រធានគណបក្សប្រឆាំងតាំងពីឆ្នាំ ១៩៩៤ មក រីឯលោក កឹម សុខា ទើបទទួលភារកិច្ចជាគណបក្សសិទ្ធិមនុស្ស នាឆ្នាំ ២០០៧ តែប៉ុណ្ណោះ ។ ក្នុងរូបភាពនេះ គេអាចឃើញថា លោក សម រង្ស៊ី ថ្វីត្បិតតែមិននិយាយ តែបានខិតខំប្រឹងបោះដៃមកលោក កឹម សុខា បានច្រើនជាង - ពីព្រោះថា សម្ព័ន្ធភាពនៃគណបក្សទាំងពីរ គឺផ្តើមពីជំនឿរបស់ពលរដ្ឋ ពុំមែនពីលក្ខខណ្ឌនៃច្បាប់ដែលយើងបានបង្កើតនោះទេ ។ ដូច្នេះនៅពេលដែលមានពលរដ្ឋខ្លះនិយាយថា ខ្លួនជាសមាជិកនៃគណបក្ស សម រង្ស៊ី ហើយនឹងនាំគ្នាប្តូរឈ្មោះទៅនៅបក្សសិទ្ធិមនុស្សទៅអនាគត បើលោក សម រង្ស៊ី នៅតែមិនព្រមបង្ហាញពីចំណងរួបរួម " សម្ព័ន្ធភាពអ្នកប្រជាធិបតេយ្យ ដើម្បីផ្លាស់ប្តូរ " ទេនោះ - ពេលនោះទើបគេដឹងថា ឧត្តមគតិតស៊ូនៅតែរស់រវើកដដែល ដោយចង់បញ្ចប់ការងាររបស់ខ្លួនឱ្យបានឆាប់ - តែគេអាចយល់បានថា លោក សម រង្ស៊ី និងក្រុមអ្នកប្រយុទ្ធរបស់លោកមានមូលហេតុអ្វីមួយដែលពុំទាន់អនុញ្ញាតឱ្យលោកបោះជំហានទៅមុខលឿនជាងពេលនេះ បាន ហើយនេះប្រាកដជាពុំមែនជាកំហុសនៅឡើយទេ ពីព្រោះនេះ គឺជា "ការប្រុងប្រយ័ត្ន " ដែលជាសញ្ញានៃការគោរពដល់ឆន្ទៈសមាជិកជាទូទៅដែលមានជំនឿមកលើគណបក្សខ្លួន ។

តទៅទំព័រទី ១៧


## The Khmer Post Directory

### East Coast Publication

Regional Editor : Pin Samkhon

Email : pinsamkhon@gmail.com

Writers : Mam Yin
Kim Phean
Im Loeurm
Bopea Chum

**Advertising**

**Marketing Manager:**

**Sabane Thach**

**Phone : 267-253-3947**

**Email : sabane.thach@gmail.com**

### West Coast Publication

RegionalEditor : Sovannara Meach

Writers : Kim Saroeurn
Ra Neat
Sophea Rith
Mey Sampos
Chan Kosal
Sovann Rith

**Phone: (562) 313-2129**

**Email: sovannara04@yahoo.com**

# បើលោកអ្នកចង់បើក ភោជនីយដ្ឋាន

# ខ្មែរ ឬវៀតណាម



## នៅ 5706 North 5th street Philadelphia PA 19120








*កាលពីមុនជាភោជនីយដ្ឋានកូរ៉េ
*ជួសជុលធ្វើថ្មីឡើងវិញ មានគ្រឿងសម្ភារៈ និងបរិក្ខាគ្រប់គ្រាន់ មានតុ កៅអី នឹងប្រព័ន្ធ ចំអិនម្ហូប
* តុ កន្លែងអង្គុយ 80
*អាចពង្រីកពាណិជ្ជកម្មបាន បើមាន Liquor Licence
*បន្ទប់ជាន់ក្រោមដីធ្វើរួចហើយ
*មានបន្ទប់ ៣ នៅជាន់ទី២
*អ្នកអាចរស់នៅជាន់ទី២ នោះបាន
*បើកបានភ្លាម Zoning និងលិខិតអនុញ្ញាតិ សម្រាប់ភោជនីយ ដ្ឋានមានស្រេច
*អាចទិញតែពាណិជ្ជកម្ម ឬក៏ជាមួយផ្ទះក៏បាន
*តុអាំងសាច់ B.BQ ចំនួន 8

### Equipements Lists

1- 80 Sitting chairs 8 Tables
2- Hood & Cooking systems
3- Central Airs Heat
4- Cash Register
5- B-B-Q Tables
6- Sign
7- TV
8- Karaoke

**Phone : (215) 668-1666**




Right Here
5706 N.5th St

N.5TH St.

Chew Ave

..."ការបន្តមរតក ឬទូកទៅកំពង់នៅ" គេឃើញធ្លាក់ទៅកូនស្រី2នាក់របស់គ្រួសារ លោក ខៀវ សំពរ ដែលពួកគេទាំង2រូប បានបង្ហាញមោទនភាពពីជីវិតរបស់ខ្លួនដែលសម្រេចបាននូវភាពរុងរឿងចំពោះផលរបររកស៊ីជំនួញ ដោយបានលើកកម្ពស់មុខមាត់ឪពុកម្តាយផ្តល់កិត្តិយសថា អ្នកមានគុណទាំង2ជាអ្នកផ្តល់នូវឱកាសល្អៗក្នុងការបង្ហាញគម្រង់ផ្លូវនៃដំណើរជីវិតតស៊ូឆ្ពោះទៅរកការជោគជ័យ មិនថាទាំងសមត្ថភាពចំពោះវិជ្ជា ឬសមត្ថភាពប៉ិនប្រសព្វផ្នែកជំនួញរកស៊ី ជាដើមនោះ ។

# មរតករុងរឿងនៃជីវិតស្ត្រីខ្មែរ2រូប

**ក្រុងខ្មែរ, ខ្មែរប៉ុស្តិ៍ : វ៉ាន់ថា**



សុង បុប្ផ (រូបឆ្វេង) និង អ្នកនាង Kathy Lor (រូបថត ឯល វ៉ាន់ថា)




អគារមជ្ឈមណ្ឌលពាណិជ្ជកម្មភ្នំពេជ្រ

•••គេនៅចាំមិនភ្លេចទេពីសំដីដែលស្ត្រីទាំង 2 រូបនេះបានថ្លែងទៅកាន់ភ្ញៀវជាតិ និងអន្តរជាតិ ដែលចូលរួមក្នុងពិធីសម្ពោធមជ្ឈមណ្ឌលពាណិជ្ជកម្មភ្នំពេជ្រ កាលពីពាក់កណ្តាលខែកក្កដាកន្លងទៅ ។ ការចាប់អារម្មណ៍របស់ភ្ញៀវ អ្នកនាង Kathy Lor និងក៏ក្នុងនាម សុង បុប្ផា តាមរយៈសុន្ទរកថាពួក គេបានរៀបរាប់ទៅដល់អតីតកាលក្នុងភាពដ៏លំបាកមួយ ដែលជាអតីតជនភៀសខ្លួនបានឆ្លងកាត់ ដោយពុះពារគ្រប់ឧបសគ្គច្រើនបែបយ៉ាងបំផុត ។

ពួកគេទាំង2នាក់ដែលជាម្ចាស់អគារពាណិជ្ជកម្មមួយនេះបានអះអាងថា "26ឆ្នាំ ដែលពួកខ្ញុំបានមករស់នៅទីនេះ (ទឹកដី Long Beach) ជាជនភៀសខ្លួនដែលឪពុកម្តាយខ្ញុំ មានការតស៊ូប្រឹងប្រែងយ៉ាងមុះមុត រហូតផ្តល់នូវក្តីសង្ឃឹម និងកក់ក្តៅថា នឹងបានទទួលនូវភាពជោគជ័យ ។ ហើយនៅទីបំផុតបណ្តាំនៃមរតកពីការអប់រំ ទាំងពាក្យសម្តីប្រៀនប្រដៅ ទ្រព្យសម្បត្តិ និងភាពវាងវៃពីការប៉ិនប្រសព្វរបស់ពួកគេទាំង2នាក់ទៀតនោះ ក៏បានរុញច្រានឱ្យជីវិតពួកគេដែលជាកូនៗខ្លះក្លាយជាសហគ្រិន ជាម្ចាស់អាជីវកម្ម ជាវេជ្ជបណ្ឌិត និងខ្លះទៀតបានទទួលនូវសញ្ញាបត្របញ្ចប់ការសិក្សាពីសាកលវិទ្យាល័យនានា ។

បុប្ផ សុង និង Lor Kathy ជាម្ចាស់នៃមុខជំនួញជាច្រើនទៀតនោះ បានប្តេជ្ញាថា នឹងខិតខំបន្ថែមល្បឿនព្យាយាមតស៊ូឱ្យខ្លួនក្លាយទៅជាបុគ្គលដ៏ល្អប្រសើរដែលយល់ដឹងពីការរស់នៅក្នុងសង្គមសេដ្ឋកិច្ចនយោបាយដោយខ្លួនឯងទៀតផង ។

លោក ខៀវ សំពរ ដែលជាអតីតអ្នកកាសែតជើងចាស់ក្នុងអំឡុងទសវត្សឆ្នាំ 1960 នៃរបបសង្គមរាស្ត្រ និយមឱ្យកាសែតលោក ខៀវ សំផន និងកាសែតកោះសន្តិភាព ដែលជាឪពុកស្ត្រីទាំង2នោះ បានបង្ហាញនូវក្តីសប្បាយរីករាយពេលឃើញកូនៗជួបនូវវាសនាល្អ និងជោគជ័យក្នុងជីវិតដែលពួកគេបានដើរតាមគន្លងឪពុកម្តាយប្រកបដោយគុណធម៌ល្អប្រពៃ តាមសុភាសិតខ្មែរមួយពោលថា "ទូកទៅកំពង់នៅ" បន្តវេនពីឪពុកម្តាយ ។

លោក ខៀវ សំពរ បានប្រាប់ថា ខ្ញុំចង់ឃើញកូនៗរបស់ខ្ញុំចូលរួមអភិវឌ្ឍន៍សហគមន៍ខ្មែរ ក្រុងខ្មែរឱ្យបានសកម្មជាមួយពលរដ្ឋ អ្នកជំនួញក្នុងភាពសាមគ្គីគ្នាទៅរកការជួយរក្សាពីអ្វីដែលជាអត្តសញ្ញាណជាតិខ្មែរ ប្រពៃណី វប្បធម៌ខ្មែរ ឱ្យស្ថិតស្ថេរនៅលើទឹកដីអរិយប្រទេសមួយនេះ" ។

ក្រុមគ្រួសារម្ចាស់អចលនទ្រព្យនៃអគារពាណិជ្ជកម្មភ្នំពេជ្រ បានបង្ហាញទឹកចិត្តឱ្យដឹងថា អគារពាណិជ្ជកម្មនេះពុំមែនជាមរតកផ្តាច់មុខសំរាប់តែគ្រួសារពួកគេប៉ុណ្ណោះទេ ។ វាគឺជាសម្បត្តិមួយដែលអាចគ្រប់បណ្តាជនានុជនទាំងឡាយមានលទ្ធភាពប្រើប្រាស់នៅក្នុងសហគមន៍ខ្មែរ Long Beach និងរួមគ្នាជាអន្តរជាតិទៀតផង ។

អគារពាណិជ្ជកម្មនេះរួមមានកន្លែងហាងមាសភ្នំពេជ្រ កន្លែងបោកខោអាវ និងកន្លែងលក់ Pizza ផងដែរ ។

ជាសក្ខីកម្មក្នុងមជ្ឈដ្ឋានមនុស្សទូទៅក្នុងនាមកាសែតខ្មែរប៉ុស្តិ៍ យើងសូមផ្តល់នូវការគាំទ្រ និងលើកទឹកចិត្តចំពោះមនុស្សគ្រប់រូបគ្រប់ស្រទាប់វណ្ណៈ ដែលជាឧទាហរណ៍ដូចជាក្រុមគ្រួសារ ខៀវ សំពរ មួយនេះជាគំរូ ដែលបានយកជីវិតទៅតស៊ូក្នុងការជំនះគ្រប់ឧបសគ្គ ដើម្បីប្រកបរបររកស៊ី រហូតបានដល់ជោគជ័យ ដោយធ្វើឱ្យជីវិតមានតម្លៃសម្រាប់យើងជាខ្មែរ ត្រូវផ្តល់នូវការកោតសរសើរ និងគាំទ្រដំណើរជីវិតមនុស្សប្រភេទបែបនេះបន្តឱ្យអ្នកដទៃទៀតសំរាប់រួមគ្នា ធ្វើការកសាង និងការផ្តុំដល់សហគមន៍ខ្មែរឱ្យមានភាពខ្លាំងក្លាជាតំបន់សេដ្ឋកិច្ច និងវប្បធម៌ខ្មែរមួយនៅលើទឹកដីគេ ដើម្បីទុកគ្រាន់បង្ហាញពីមោទនភាពខ្មែរបន្តតំណកូនចៅជំនាន់ក្រោយៗ ៕



អត្ថបទមនោសញ្ចេតនា

# ក្តីស្នេហ៍គ្មានទីបញ្ចប់...!

**ដោយ : គឹម កៀន** *(តពីលេខមុន)*

●●●ពេលភ្លើងហ្វាទី២ ផ្ទុះឡើង ឆ័ត្រយោងបានបំភ្លឺឡើងភ្លើងភ្លឺដូចថ្ងៃ គេក៏ឃើញស្រមោលខ្មៅ នៅនឹងថ្កល់មួយកន្លែង ។ ក្រុមអ្នកល្បាតនៅទីនោះ ចង្អុលបង្ហាញទៅចៅហ្វាយរបស់ខ្លួនយ៉ាងប្រញាប់ :

- នោះ ! ក្រោមគល់ស្វាយ នៅជិតរបងលួសបន្លា ស្រមោលខ្មៅអត់កម្រើកទៀតទេ ។ វាប្រាកដជាត្រូវគ្រាប់ហើយ ។ លោកអនុសេនីយ-ឯក ចង់ឱ្យទៅសង្កេតដល់កន្លែងឬទេ ។

លោកចៅហ្វាយដែលមានទឹកមុខស្វាត់ស្ងៀមនោះ តបវិញ ដោយត្រិះរិះ :

- កុំអាលសិន ចាំមើលស្ថានភាពឱ្យបានច្បាស់លាស់សិន តែតាមដានឱ្យជាប់ជានិច្ចចំណុចខ្មៅនោះ ។ ប្រហែលជាមានគ្នាវានឹងតាមមកអូសខ្មោចយកទៅ ចាំបាញ់រះគ្នាវាថែមទៀត ។ កុំទៅជិតនោះឱ្យសោះ ប្រយ័ត្នវាបាញ់គ្នាយើង ។ អ្នកក្រោមបញ្ជា បានឆ្លើយ "បាទ" យល់ស្របស្មើគ្នា។

កម្លោះ វិរៈ ធ្ងន់ក្នុងចិត្តគិតរវើរវាយពីនេះពីនោះ... មួយគ្រាប់ប្រាវ ! ខ្មែរម្នាក់ ឬពីរនាក់ស្លាប់ ! ស្លាប់ខ្មែរដូចគ្នា តែខ្មែរម្ខាង១ បានទុកគ្នាជាសត្រូវ ! មិនបាញ់ប្រហារខ្លួនឯង នឹងត្រូវគេបាញ់សម្លាប់ គេទុកឯងជាសត្រូវរបស់គេ គេតាមមករកសម្លាប់ដល់កន្លែងតែម្តង ! អ្នកណាបានធ្វើឱ្យបងប្អូនឯងសម្លាប់គ្នាឯងនេះ ? អ្នកណានឹងដោះចេញនូវប្រព័ន្ធកាប់សម្លាប់បង្ហូរឈាមគ្នាឯងនេះ ?

ភ្លើងហ្វាមួយទៀតបានបំភ្លឺឡើង ! រួចហើយមួយទៀត ! រួចហើយមួយទៀត រហូតទល់ភ្លឺ !

ព្រឹកព្រាងភ្លឺច្បាស់ អ្នកសង្កេត ពិនិត្យ បានលទ្ធផលជាវិជ្ជមានដូចពេលមុន១ដែរ : "ចុងបន្ទាយខាងជើង មានខ្មាំងជាប់មុឹនស្លាប់ម្នាក់ កំបុតជើង ពីរនាក់ ដេកនៅមួយកន្លែង ។ ពីខាងក្រោយបន្ទាយ គឺនៅទិសខាងលិច ខ្មាំងបានលួចចូលកាត់របងលួចបន្លា ត្រូវបាញ់ស្លាប់នៅនឹងកន្លែងម្នាក់ ។ អ្នកទាំងអស់គ្នាសុទ្ធតែខ្មែរ ! ខ្មែរជាខ្មាំងសត្រូវនឹងគ្នា !

(1) ឡឹម= ឃ្លាំង ឬជង្រុកធំ១សម្រាប់ដាក់ស្រូវ ។

តាំងគោកធ្លាប់តែមានសភាពស្ងប់សុខប្រជាពលរដ្ឋដឹងតែពីការរកទទួលទានក្នុងសន្តិភាព ប៉ុន្មានឆ្នាំនេះ តាំងគោកជ្រួលច្របល់ក្នុងផ្សែងរំសេវ ក្រោមស្នូរគ្រាប់បែកណាប៉ាល់កក្រើកផែនដី ស្នូរកបាល់ហោះផ្ទុកពេញដោយកំហឹង ដាំក្បាលចុះស្ទើបប្រាស់ចុងឈើ បញ្ចេញផ្សែងចុងកន្ទុយ ហើយងើបក្បាលឡើងវិញ គ្រាប់បែកធំ១ហួរចុះមកលើប្រថពី : កំហឹងអ្នកការពារទឹកដីបានផ្ទុះជាសម្លេង បង្ហាញដល់សត្រូវឈ្លានពានថា យើងជាខ្មែរ មិនបណ្តោយឱ្យទឹកដីរបស់ខ្លួនបាត់បង់ទៅលើបាតដៃធ្លាប់តែប្រឡាក់ឈាមខ្មែរពីដូនតាពួកវាទៀតនោះទេ ។

កំពុងតែលង់ក្នុងការស្រមៃ នឹកដល់រឿងអតីតកាល រឿងបច្ចុប្បន្ននៃដែនដីដ៏កំសត់របស់ខ្លួន វិរៈ ក៏បានឮសម្លេងតិច១ "ព្រះតេជគុណមានរឿងចម្លែកដូចថ្ងៃមុនទៀតហើយ ! គេចាប់បានខ្មែរក្រហមម្នាក់មកចង់នៅបង្គោលទង់ជាតិវិទ្យាល័យតាំងគោក ហើយគេបម្រុងយកប្រជាជនទៅវះសាច់វាម្នាក់មួយផ្ទាំង ដើម្បីធ្វើទារុណកម្មចំពោះអំពើឃោរឃៅរបស់ពួកវា " ។

វិរៈ ភ្ញាក់ខ្លួនក្រញ៉ាងពីដំណេកនៅពេលព្រលឹមថ្ងៃអាទិត្យនោះ ដោយពីយប់មិញបានខំតស៊ូទប់ទល់នឹងការបាញ់រំខានរបស់សត្រូវ ។

-គេនោះ គឺអ្នកណា ?

-ព្រះតេជគុណ នោះគឺលោកស័ក្តិ៥ ឧទាន ! វិរៈ តក់ស្លុតយ៉ាងខ្លាំង ថ្ងៃមុនមានរឿងរបៀបនេះម្តងរួចមកហើយ គឺចាប់យួនកុម្មុយនីស្តមកពីហាណូយម្នាក់ បញ្ជោទ័ពឱ្យចូលមកវាយបន្ទាយ ហើយវាខកខ្លួនវង្វេងផ្លូវរកផ្លូវរត់ពុំឃើញ ក៏ត្រូវចាប់មកចង់នឹងបង្គោលទង់ជាតិវិទ្យាល័យតាំងគោក បំណងនឹងពន្លះសាច់ម្តងរួចមកហើយ ។ វិរៈ បានតស៊ូយោបល់យ៉ាងតឹងតែងទើបបាន លោក ណៃខុន យល់ស្រប ហើយឱ្យកូនចៅស្រាយចំណងសត្រូវរូបនោះ ហើយបញ្ជូនឱ្យទៅថ្នាក់លើវិនិច្ឆ័យ ។ ព្រោះមនុស្សធម៌នៅក្នុងខ្លួនមិនអាចអនុញ្ញាតឱ្យ វិរៈ បណ្តោយឱ្យការធ្វើរបៀបអមនុស្សធម៌នេះ កើតឡើងបានទេ ។ ការតវ៉ាយ៉ាងតឹងសរសៃកនោះ បានធ្វើឱ្យលោកស័ក្តិ៥ ណៃខុន ជេរលថា " ស័ក្តិពាវិរៈឯងកាន់ជើងយួន" សុខចិត្តមិនឆ្លើយតបឱ្យតែលោក ណៃខុន សុខចិត្តដោះលែងជនឈ្លើយសិកនោះចេញពីការពន្លះសាច់យ៉ាងព្រៃផ្សៃនោះ ។

***សូមរង់ចាំអានលេខបន្ត***

## សូមខន្តីញោម !

ចំណីខែខាទីកំប្លែង

**ដោយ : គឹម កៀន**

●ខន្តី និងពាក្យថា ឧបេក្ខា ជាពាក្យស្រួលថា ស្រួលនិយាយ តែពិបាកប្រតិបត្តិ ! នេះជារឿងមួយដែលធ្លាប់ឮសម្តេច ហ៊ុន សែន ធ្លាប់លើកមកនិយាយចែកគ្នាស្តាប់ :

មានគ្រូសូត្រស្តាំមួយអង្គបានលាចាកសិក្ខាបទទៅហើយ បានរៀបការជាមួយនារីម្នាក់ល្បីថា ស្អាតផ្ទៀងមេឃរញ្ជួយដី សំដីពិរោះដូចសត្វប្រវឹករងាវបួលរកគូវា !

សុភមង្គល បានលាតសន្ធឹងពីកូន១ រហូតដល់កូន២... ដល់កូន៣ រហូតដល់ថ្ងៃមួយ សម្លមិនឆ្ងាញ់ សំដីក៏លែងពីរោះ ប្តូរបងអូនទៅជា អញ ឯង... ។ ពេលមកលេងវត្តជួបលោកគ្រូឧបជ្ឈាម្តង១ លោកអតីតគ្រូសូត្រតែងតែត្អូញត្អែថា : ប្រពន្ធខ្ញុំកុណា គេផ្លាស់ប្តូរច្រើនណាស់... គេលែងល្អដូចមុនទៀតហើយ បានកូនមួយកាចថែមបន្តិច ...ដល់កូនបី គេបានក្លាយជាអ្នកណាម្នាក់ ខ្ញុំកុណាទ្រាំលែងបាន កាចហួចនិស្ស័យ ! ។ ពេលគ្រូឧបជ្ឈា ចេះតែលួងលោមគ្រប់ពេលដែលព្រះអង្គបានស្តាប់ការត្អូញត្អែរពីសិស្សគន់របស់ខ្លួន :

- ខន្តីទៅញោម ! ជីវិតសត្វលោកមិនបានសុខរហូតទេ ដូចជាពេលវេលាក៏មានផ្លាស់ប្តូរដែរ ម្តងក្តៅ ម្តងភ្លៀង ម្តងរាំងស្ងួត ម្តងលិចជោរជន់ ! ខំខន្តីឱ្យរលកជីវិតឆ្លងឱ្យផុតសេចក្តីស្ងាត់ស្ងៀមនឹងត្រឡប់មកវិញ ។ ជីវិតគឺយ៉ាងនេះឯង បើគ្មានខន្តី. ឧបេក្ខា ហើយប្រតិកម្មតាមកំហឹងតាមចិត្តព្រៃរបស់ខ្លួន ការខូចខាតនឹងកើតមានធំហួសពីការស្មានរបស់យើង ។ មិនអីទេ ចាំអាត្មាមានឱកាសនឹងទៅលេងជាមួយគ្រួសារញោមម្តង ក្រែងបានជំនួយល្អដល់គ្រួសារ ញោម ! ។

ថ្ងៃមួយលោក ឧបជ្ឈា និមន្តទ្រង់បាទកាត់ផ្ទះអតីតគ្រូសូត្រ ក៏ឮស្នូរសម្លែងអាម៉ឹងពីលើផ្ទះចុះមក ។ បុរសជាប្តីរត់ចុះពីលើផ្ទះជាប្រញាប់ មិនទាន់ចិត្ត ក៏លោតចោល២កាំចុងក្រោយ កុំឱ្យប្រពន្ធតាមមកទាន់ ។ រត់ចុះបានដល់ដីភ្លាម ក៏ឃើញគ្រូរបស់ខ្លួននិមន្តជិតមកដល់ ។ អតីតលោកគ្រូសូត្រ តម្រង់ទៅលោកគ្រូរបស់ខ្លួន គិតថ្វាយបង្គំ " ទៀតហើយលោកគ្រូអើយ ! ខ្មោចចូលវាទៀតហើយ ! មិនទាន់ចង្ហាន់ទេព្រះអង្គ ! សូមមេត្តាអភ័យទោស... " ។ ស្រាប់តែឮស្នូរខ្វាប់ ! អតីតលោកគ្រូសូត្រ ត្រូវប្រពន្ធគប់មួយស្បែកជើងជីបតុង ។ តែសំណាងគាត់នៅល្អគ្រប់គ្រាន់ ! ស្បែកជើងបានគេជផុតពីក្បាលរបស់គាត់ទៅត្រូវព្រះត្របហស្តទាំងពីរ កំពុងទ្របាត្រនៃព្រះគ្រូឧបជ្ឈា ។ ព្រះអង្គភ្ញាក់ដូចកន្ទ្រាក់ "ចុមកណ្តុមឆែប " បែរទៅមើល ក៏ឃើញប្រពន្ធគ្រូសូត្រកំពុងកាន់ស្បែកជើងជីបតុងម្ខាងទៀតមិនទាន់គប់បង្ហើយ ! ។ លោកគ្រូឧបជ្ឈាលើកបាត្រឱ្យគ្រូសូត្រជួយកាន់ជំនួស : " កាន់បាត្រឱ្យអាត្មាមើល អាត្មាប្រដៅវាម្តង ! " ។ ឃើញសភាពមិនស្រួលប្រពន្ធគ្រូសូត្រ "បត់ក្រោយបែរ" ហើយក៏រត់ឡើងផ្ទះវិញ ។ លោកគ្រូឧបជ្ឈា មិនទាន់បាត់ក្តៅត្រចៀកក៏ប្រឹងឡើងជណ្តើរតាមក្រោយ បាន២-៣កាំ ។ ព្រះអង្គក៏ឈប់ទ្រឹងទៅវិញ ពេលឮលោកគ្រូសូត្រកំពុងបីទ្របាត្រស្រែកពីក្រោយមក :

- " ខន្តី -ឧបេក្ខាព្រះគ្រូ ! ប្រពន្ធកុណាកំពុងមានផ្ទៃពោះកូនទី៤ ! ។ ព្រះអង្គភ្ញាក់ពីក្រេវក្រោធ ក៏ចុះពីជណ្តើរម្តងមួយកាំ១ :

- ខន្តី ខន្តី ! ឧបេក្ខា ! ឧបេក្ខា ! អនិច្ចារ ! អនិច្ចារ ! ជីវិតសត្វមិនទៀង ការក្រេវក្រោធ សេចក្តីលោមហាម... ទាំងអស់នេះជាកិលេស ! អាត្មាបានបណ្តោយឱ្យកិលេសញាំញីហើយ ! អនិច្ចារ ! អនិច្ចារ ! កិលេសនេះក៏អនិច្ចារដែរ ។ ព្រះអង្គបានទៅទទួលបាត្រពីសិស្សរបស់ខ្លួន ហើយនិមន្តតម្រង់ទៅអារាមវិញ ទាំងបាត្រទទេស្អាត ! ៕

**The Cambodia Daily**

Saturday- Sunday August 1-2-2009 ដើម្បីស្វាគមន៍ដល់លោកអ្នកអានថ្មីៗទៀត... ខ្មែរប៉ុស្តិ៍បានសម្រេចដកស្រង់ព័ត៌មានជាភាសាអង់គ្លេស ដែលនាយកសារព័ត៌មាន The Cambodia Daily បានអនុញ្ញាតិឱ្យយើងចុះផ្សាយ ដើម្បីជាព័ត៌មានពីកម្ពុជាដល់សាធារណជន ដែលមិនអាចអានព័ត៌មានជាភាសាខ្មែរបាន ។

# Police Seeking Terror Charges Against Activist

By Prak Chan Thul
THE CAMBODIA DAILY

Provincial police in Ratanakkiri are seeking terrorism charges against a human rights activist who is the subject of high-level antagonism due to his work in land disputes.

Related story, see page 13

The rights group Adhoc said on Thursday that it had already withdrawn provincial coordinator Pen Bonnar and another Ratanakkiri activist from the province, but denied that this was done at the suggestion of Judge Thor Saran, who had advised that Mr Bonnar leave the province and therefore the court's jurisdiction in order to avoid pending incitement charges.

Judge Saran said Friday that police have now asked the provincial court to charge Mr Bonnar with inciting terrorism as a result of a confrontation in November between ethnic minority land protesters and police.

"Police have already filed it and the prosecutor already accepted [a complaint] of incitement to commit terrorism," the judge said by telephone, adding that the court has yet to rule on the complaint.

( Continued on page 13 )

# Gov´t Mum on Details of Oil Deal With Total

By Simon Marks
THE CAMBODIA DAILY

Government officials provided few details on Friday as to why a major oil and gas exploration deal with the French petrochemical giant Total appears to have been torpedoed at the last minute.

On July 19 the government announced at a news conference that it had awarded exploration rights to Total for 2,430-square-km within the 27,000-square-km "overlapping claims area" in the Gulf of Thailand as well as 22,000 square-km of land around the Mekong River bordering Vietnam.

Total, however, revealed on Thursday that the government has pulled out of what the company believed was a done deal, and has asked for numerous changes within the contract despite the Council of Ministers having approved the exploration rights just last month.

Council of Ministers spokesman Phay Siphan said that there was a full ministerial session held on Friday morning during which governmental negotiations with Total were not discussed in depth. He added that he was unable to provide any further details.

A man answering the phone of Cabinet Minister Sok An, who would only identify himself as an assistant, said only that he believed negotiations with Total were still taking place. Mr Sok An is heading up negotiations between the government and Total. Te Duong Tara, director general of the Cambodian National Petroleum Authority said he was too busy to comment Friday.

Jean Pierre Labbe, Total's general manager for exploration and production in Cambodia, said in an interview on Thursday that Total had learned to its shock about the government's new contractual requests at a Wednesday meeting between company officials and the Cambodian National Petroleum Authority at Mr Sok An's private residence in Phnom Penh.

The deal to that date had already taken three years to form, Mr Labbe said, adding that the government's apparent about face on the deal would speak volumes on foreign investment in Cambodia.

"[The deal] really depends on the Prime Minister," Mr Labbe added on Friday.

"If he wants to install credibility in the investment climate in Cambodia he will sign the accord. If not then there will be an impact on the government's credibility," Mr Labbe said, adding that negotiations with the government were still ongoing but would take a back seat until August 24 when officials are due to meet and hold further discussions over the deal.

Mr Labbe said that the principal problem outlined by Mr Sok An during Wednesday´s meeting cerned fiscal agreements with regard to how much of the revenue derived from the concession would go to the government and how much would go to Total.

Fabyene Mansencal, first secretary at the French Embassy in Phnom Penh, said that the climate for foreign businesses in cambodai in light of a possible end to the deal with Total was " a grave Question. " But she refused to provide any further details " at this stage. "

A number of private investors also declined to comment on the potential repercussions on investor confidence if the Total deal officailly collapses.

Yim Sovann, Lowmaker and spokesman for the opposition SRK, said that he had not seen contract, confidence in the country would be demaged.

" if you continue to do like this cambodai will lose confidence investors, " he said. "investors bring a lot of money to the contry." he added.

Total´s troubles come just over a week ofter the English-language Thai newspaper the Nation reported that cambodai´s Foreign Minister Hor Namhong had informed Thai Prime Minister Abhisit Vejjajiva that not work will place in the disputed offshore Block 3 until the two contries resolve their disputes along the entire common border.

Prior to Mr Namhong´s visit to Thailand, The Nation also reported that the Thai military was drawing a military contingency plan for the overlapping claims area in response to cambodai´s announcement that they would permit Total to carry out exploration operations in Area 3.

# *EU, Government Talk on State of Human Rights*

By Simon Marks
THE CAMBODIA DAILY

Representatives from the European Union in Phnom Penh met with officials from the Ministry of Foreign Affairs on Friday to express concern at the human rights situation in Cambodia, specifically freedom of expression and the rule of law.

British Ambassador Andrew Mace, who is representing Sweden in their presidency of the EU, German Ambassador Frank Marcus Mann and the European Commission Charge d'Affaires Rafael Dochao-Moreno attended the meeting with Ouch Borith, secretary of state at the Ministry of Foreign Affairs, who represented the government.

The EU expressed "concern over a number of instances in which criminal charges of defamation and disinformation have been used against representatives of civil society, the media and the political opposition," the EU said in a demarche, or statement, following the meeting, adding that transparency, the rule of law, freedom of expression and open political debate are indispensable elements of democracy.

"Respect for the democratic principals and human rights established by the Universal Declaration on Human Rights constitutes an

( Continued on page 13 )

(តមកពីទំព័រទី ០២)

# ផលិតកម្មបិទទ្វារជាបន្តបន្ទាប់...

ឱ្យគេរាល់ខែ ប្រពន្ធកូនស្ដីបន្ទោសឱ្យរាល់ថ្ងៃ អាចឈ្លោះទាស់ទែងគ្នាក្នុងគ្រួសាររបស់ខ្លួន រហូតដល់បែកបាក់គ្នាក៏មានដែរ ។ បន្ទាប់មក ត្រូវរត់ទៅធ្វើការឱ្យ គេដូចដើមចាប់ផ្ដើមសារជាថ្មីដើម្បីយកលុយមកបង់ថ្លៃផ្ទះ ចិញ្ចឹមកូន និងដោះបំណុលគេ ។

ប៉ុន្មានឆ្នាំក្រោយបន្ទាប់ពីសន្សំលុយបានមួយចំនួនអាចមកព្យាយាមសាកល្បងម្ដងទៀត ព្រោះវាជា ចំណង់ចំណូលចិត្តរបស់ខ្លួន លុះពេលផលិតកម្មនេះកើត ហើយបងប្អូនគាំទ្រ ហើយមានឈ្មោះបោះសម្លេងបានកម្រៃល្មមអាចរស់មានសេចក្ដីសុខជាមួយប្រពន្ធកូនបានហើយ បែរជាជួបរឿងអាក្រក់គួរឱ្យឈឺចាប់ គឺផលិត-កម្មនេះ ត្រូវដួលរលំបិទទ្វារទៅវិញ ដោយស្នាដៃពួកជនទុច្ចរិតដែលជាចោរអប្បលក្ខ័ណ៍ជូរជាតិឃ្លាតពីច្បាប់មនុស្ស វាលួច Copy ចម្លងយកទៅលក់ក្នុងតម្លៃថោកៗជូនបងប្អូនខ្មែរយើងមួយចំនួនដែល លោក ឆាន ឈួរ បានអះអាងថា "បងប្អូនខ្វះការពិចារណាវាងគុណ និងទោសបុណ្យ និងបាបដោយថែមទាំងបញ្ចេញទស្សនៈរបៀបឆ្វេងនិយមថា ទិញរបស់ Copy ក៏ល្អម្យ៉ាងដែរ ព្រោះតម្លៃវាថោកគុណភាពចុះបន្ដិចមែន តែអាចប្រើការបាន" ។ ដោយ អ្នកទាំងនោះភ្លេចគិតថា បើទិញរបស់ពីចោរហើយ តើម្ចាស់ផលិតកម្មយកផលិផលរបស់ខ្លួន ទៅលក់នៅឯណា ? ទីបំផុតម្ចាស់ផលិតកម្មត្រូវដួលរលំបិទទ្វារចោលសិល្បករអត់ការងារធ្វើ ចោរក៏គ្មានរបរលួច Copy ទៀត ឯបងប្អូនក៏គ្មានរបស់ថោកនេះទិញទៀតដែរ រីឯវិស័យសិល្បៈ វប្បធម៌ត្រូវបាត់បង់ ឬដើរថយក្រោយ តើវាជាកំហុសអ្នកណា ?

ឆាន ឈួរ បានបន្តថា "បើចោរទៅចុះ វាជាចោរទៅហើយ វាចិញ្ចឹមកូនរបស់វាឱ្យធំធាត់ឡើងដោយកម្លាំងញើសឈាមអ្នកដទៃទៅហើយ ពេលវាលួចគេបាននៅពេលម្ចាស់ គេធ្វើអ្វីវាមិនកើត វាសើចសប្បាយ វាគិតថា វាឆ្លាត វាពូកែរកស៊ី ទើបវាមានលុយ វាគ្មានខ្វល់ពីកិត្តិ-យសកេរ្តិ៍ឈ្មោះអ្វីទេ" ។ ហើយចុះបងប្អូនដែលទិញរបស់ Copy ពីចោរវិញ ហេតុអ្វីក៏មិនពិចារណាឱ្យបានវែងឆ្ងាយ បើបងប្អូនមិនទិញរបស់ពីចោរ តើចោរវាលួច Copy របស់គេលក់ទៀតទេ ? ។

ក្រុមម្ចាស់ផលិតកម្មហាក់ស្ដីបន្ទោសថា សូមកុំភ្លេចថា បងប្អូននឹងហើយគឺជាមូលហេតុ ដែលនាំឱ្យចោរលួចរបស់គេលក់ ហើយបំផ្លាញផលិតកម្មនានាឱ្យដួលរលំបំផ្លាញសិល្បៈវប្បធម៌ឱ្យបាត់បង់ ឬឱ្យដើរថយក្រោយ ។ ដោយពួកគេក៏បានអង្វរករដោយលើកយកន្ទូវអត្ថន័យក្នុងផ្លូវព្រះ-ពុទ្ធសាសនាដែលបានថែងថា "អ្នកបំផ្លាញគេ គឺបំផ្លាញខ្លួនឯង" ហើយអ្នកលួចគេមានបាបកម្មប៉ុណ្ណា បងប្អូនដឹងហើយនេះជាកំហុសដ៏ធ្ងន់ធ្ងរមួយដែលបងប្អូនបានប្រព្រឹត្តិបានធ្វើដោយមិនដឹងខ្លួន ។

ម្ចាស់ផលិតកម្មមាតុភូមិ គុជ ចន្ថា អំពាវនាវថា បងប្អូនគួរជួយគាំទ្រជនទុច្ចរិត ឬជនសុចរិតរកស៊ីទៀងត្រង់ ដែលសុំតែមារស់ក្នុងជីវភាពដែលខ្លួនខិតខំដោយមិនខ្លាចនឿយហត់ចំណាយលុយអស់ច្រើន និងបានចូលរួមលើកកម្ពស់វិស័យសិល្បៈ វប្បធម៌ខ្មែរទៀតផង ។ ដូច្នេះនេះជាជម្រើសបងប្អូនត្រូវគិតត្រូវពិចារណាទៅចុះ ។

ចំណែក ហ៊ាង លីណា ម្ចាស់ផលិតកម្ម សិលាផ្កាយព្រឹក បានគ្រវីក្បាលដាក់ខ្មែរប៉ុស្ដិ៍ ដោយដកដង្ហើមធំៗថា លែងចង់រកស៊ីហើយខំប្រឹងធ្វើចង់ងាប់នៅទីបំផុតគេលួចចម្លង (Copy) ធ្វើមានបាន... គិតសព្វៗទៅរកស៊ីចិញ្ចឹមតែប្រពន្ធកូនរបស់ពួកចោរ ។ ហ៊ាង លីណា អំពាវនាវសូមឱ្យបងប្អូនដែលបានដឹងឮ ឬឃើញអ្នកលួច Copy សូមប្រាប់មកកាន់យើងខ្ញុំ យើងខ្ញុំនឹងមានរង្វាន់លើកទឹកចិត្ត ហើយព្រមានថា បើក្រុមហ៊ុនយើងខ្ញុំដឹងនឹងចាប់ចោរលួចចម្លងបានយើងនឹងផ្ដន្ទា-ទោស តាមផ្លូវច្បាប់ ឬពិន័យជាប្រាក់ 25,000 ដុល្លារអាមេរិក ។

លោក ឆាន ឈួរ និយាយថា ម្ចាស់ផលិតកម្មដែលត្រូវគេបំផ្លាញឱ្យដួលរលំមានការឈឺចិត្ត និងខកចិត្តខ្លាំងណាស់ ជាពិសេសពេលឃើញផលិតផលរបស់ខ្លួននៅតាមឡានដែល គេបើកលក់តាមភូមិខ្មែរ ឬនៅតាមហាងមួយចំនួនជាផលិតផលក្លែងក្លាយ (Copy) ដែលអ្នកលក់ទាំងនោះ មិនបានទិញពីខ្លួន។

នៅទីក្រុងខ្មែរ Long Beach មានកន្លែងលក់កុន ជួលកុន Karaoke, DVD, CD ជាច្រើនកន្លែងមិនថា អ្នកម្ចាស់ផលិតខ្លួនឯង ឬ អ្នកមិនជាម្ចាស់ផលិតកម្មនាំគ្នាបើកបររកស៊ីទៅតាមសមត្ថភាព ឬលទ្ធភាពរៀងៗខ្លួន


ម្ចាស់ផលិតកម្ម មយូរ៉ា ឆាន ឈួរ


លោកម៉ៃម៉េត ម្ចាស់ក្រុមហ៊ុន SM រូបខាងឆ្វេងដៃ


លោក គុជ ចាន់ថា ម្ចាស់ផលិតកម្មមាតុភូមិ

មិនថា ចំណេញ ឬខាតឡើយ ។

ក្រុមអ្នកស្រុកនៅ Long Beach នាំគ្នានិយាយថា របស់ទិញវាថោក មើលហើយជិនណាយឈប់មើលមិនខ្វល់ពីគុណភាព ឬគ្មានគុណភាព ទុកមិនទុកទេ បើមនុស្សមួយចំនួនធំគេទៅអញ្ចឹងអស់ហើយ តទៅទំព័រទី ១៩





# តំណាងរាស្ត្រខ្មែរ មួរ សុខហួរ មកហ្វីឡា

ដោយ : ខ្មែរប៉ុស្តិ៍

❖❖គណបក្ស សម រង្ស៊ី នៅហ្វីឡាដែលហ្វីយ៉ា បានផ្សព្វផ្សាយដំណឹងពីការមកដល់របស់លោកស្រីតំណាងរាស្ត្រ មួរ សុខហួរ នៅថ្ងៃទី៥ កញ្ញា ២០០៩ ដែលថ្មីៗ នេះ ទើបនឹងចាញ់ក្តីជាមួយលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ពីបរិហាកេរ្តិ៍ នៅសាលាក្តីកម្ពុជា ។

លោកស្រី មួរ សុខហួរ ជាតំណាងរាស្ត្រខាងគណបក្ស សម រង្ស៊ី បានបាត់បង់អភ័យឯកសិទ្ធិនៅសភាខ្មែរ តែលោកស្រីនៅតែបន្តការតស៊ូខាងផ្លូវច្បាប់ ប្រឆាំងនឹងរបបភ្នំពេញ ដែលលោកស្រីបានប្រកាសដោយគ្មានលាក់លាមថា " តុលាការនៅក្រោមសម្ពាធរដ្ឋាភិបាល ហ៊ុន សែន " ។

គណបក្ស សម រង្ស៊ី នៅហ្វីឡាដែលហ្វីយ៉ា ដឹកនាំដោយលោក មាស ជា នឹងរៀបចំឱ្យសាធារណជនបានតាំងសំនួរស្តីពីស្ថានភាពនៅកម្ពុជា នៅភោជនីយដ្ឋាន GRAND KING BUFFET 40-44 SNYDER AVE. PHILA - DELPHIA, PA 19148.

ថ្ងៃទី ៥ ខែកញ្ញា ឆ្នាំ ២០០៩
តម្លៃចូលរួម **$ 20**
ទូរស័ព្ទ លោក **មាស ជា**
**( 215 ) 833-3669.**

# ប្រពន្ធទី2 ដាប ឈួន រម្លឹករឿង
# តេចាប់ប្តីយកទៅសម្លាប់

ក្នុងសម័យអាណានិគមនិយមបារាំង ពួកវាបានលាបពណ៌កូនខ្មែរឱ្យមើលមុខគ្នាមិនត្រង់ ហើយបង្កឱ្យឈ្លោះប្រកែកគ្នាមិនចេះចប់ ។ ជាពិសេសនោះ បើពួកវាស្អប់អ្នកណាម្នាក់តែងចោទថា ចូលដៃជាមួយខ្មែរឥស្សរៈ ឬបើខ្មែរឥស្សរៈគ្នាឯងចោទប្តីគ្នាថាចូលដៃជើងជាមួយនឹងបារាំងក៏ចាប់ យកទៅសម្លាប់ទាំងភ្នែកស្រស់គ្មានការស្តាយស្រណោះបន្តិចសោះឡើយ ។

**សៀមរាប, ខ្មែរប៉ុស្តិ៍ : ប៊ុត បូ**

•••ជាក់ស្តែង ដាប ឈួន អតីតមេទ័ពខ្មែរ ឥស្សរៈដែលបានដឹកនាំកងទ័ពនៅតំបន់សៀមរាប ប្រឆាំងនឹងបារាំងដើម្បីរំដោះជាតិមាតុភូមិ ក្រោយមកត្រូវគេចោទថា ក្បត់ក៏ចាប់ចងតាមឡានយកទៅសម្លាប់យ៉ាងអាណោចអធម ។ ចាប់តាំងពីពេលមានព្រឹត្តិការណ៍នោះ មកសាច់ញាតិរបស់គាត់មានអារម្មណ៍ភ័យខ្លាចរស់នៅលាក់ខ្លួនពួនអាត្មាមិនឱ្យគេស្គាល់សាវតារឡើយ ។

ដាប ឈួន ហៅ ( មូលពេជ្រ) មេខ្មែរឥស្សរៈ ប្រឆាំងនឹងបារាំងនេះ សម្រាប់ពលរដ្ឋខ្មែរ ដែលមានវ័យចំណាស់ គឺសុទ្ធតែបានស្គាល់ឈ្មោះគ្រប់ៗគ្នា ហើយមិនបានដឹងពីមូលហេតុពិតប្រាកដនៃការស្លាប់បាត់បង់ជីវិតរបស់គាត់ឡើយ ។ ពួកគាត់គ្រាន់តែដឹងថា "ដាប ឈួន ក្បត់ប៉ុណ្ណោះ" ។

ជាសំណាងល្អថ្មីៗនេះ កាសែតខ្មែរប៉ុស្តិ៍បានជួបជាមួយភរិយាទី2របស់ ដាប ឈួន គឺលោកយាយ ចាន់ ឆោម ហៅ ( កណ្តុំ សក្តិ) អាយុ 80ឆ្នាំ រស់នៅភូមិ-ឃុំត្បែង ស្រុកបន្ទាយស្រី ខេត្តសៀមរាប បានផ្តល់បទសម្ភាសន៍ទាំង រតាប់រតុបភ័យផង អរផង ពីព្រោះគាត់មិន ដែលមានអ្នកណាទៅសម្ភាសន៍នោះទេ ។

លោកយាយ កណ្តុំ សក្តិ បានរៀបរាប់ពីខ្សែ ជីវិតរបស់ ដាប ឈួន ហៅ ( មូលពេជ្រ) ថានៅ សម័យបារាំងប្តីរបស់គាត់បានមកបង្កបង្កើតទ័ពនៅខេត្តសៀមរាប ដើម្បីប្រឆាំងនឹងពួកបារាំង ដែលកាលណោះគាត់មានវ័យ16ឆ្នាំ ក៏ចាប់ចិត្ត ស្រឡាញ់គ្នា ដោយយកគាត់ធ្វើជាស្រីកំណាន់ ។ ជាពិសេសនោះ ក្រោយមកប្តីគាត់បានចាត់តាំងឱ្យគាត់ធ្វើជាប្រធានកងនារីក្លាហានមានគ្នីគ្នាចំនួន 12នាក់ ។

លោកយាយ កណ្តុំ សក្តិ បន្តថា គាត់ និងប្តី ស្រឡាញ់គ្នាខ្លាំងណាស់ ទោះបីជាគាត់មានប្រពន្ធច្រើន ក៏ដោយ ក៏មិនដែលចោលគាត់ដែរ ហើយគាត់មានកូនស្រីម្នាក់បានបាត់ខ្លួននៅសម័យ ប៉ុល ពត ដែលធ្វើឱ្យគាត់ជាម្តាយមានការសោក សង្រេងរស់នៅគ្មានទីពឹងដើរសុំផ្ទះសម្បែងក្មួយជ្រកកោនប៉ុណ្ណោះ ។

ភរិយាលោក មូលពេជ្រ បានរម្លឹកថា ប្តីរបស់គាត់មានសេចក្តីអង់អាចក្លាហានខ្លាំងណាស់ ធ្វើសង្គ្រាមជាមួយបារាំងមិនដែលចាញ់ទេ ពីព្រោះគាត់មានប្រាជ្ញាឈ្លាសវៃ និងមានវេទមន្តសម្រាប់ការពារខ្លួន ( បាញ់មិនមុត ដុតមិនឆេះ) ដែលធ្វើឱ្យសត្រូវខ្លាចគាត់មិនសូវហ៊ានតតាំងឡើយ ។

អតីតភរិយារូបនេះបានអះអាងថា ពីអ្នកស្រុកស្រុះស្រួលគ្នាស្ម័គ្រចិត្តដើរតាម ដាប ឈួន កាន់តែច្រើន ហើយច្បាំងឈ្នះបារាំងនៅឆ្នាំ 1953 សម្តេចឪក៏ហៅឱ្យមករួបរួមគ្នាបំពាក់សក្តិនៅតំបន់អង្គរដាក់ឈ្មោះថា "កងទ័ពឯកទេសខ្មែរ" និងក្រោយមកព្រះអង្គនាំទៅប្រជុំនៅក្រុងហ្សឺណែវទាមទារឯករាជ្យទៀត ។ ជាពិសេសប្តីគាត់ ដាប ឈួន ត្រូវបានព្រះបាទ នរោត្តម សីហនុ ប្រទានងារជា មូលពេជ្រ ដែលបង្ហាញពីសេចក្តីអង់អាចក្លាយហានក្នុងសមរភូមិសង្គ្រាម ។

លោកយាយ កណ្តុំ សក្តិ បានបញ្ជាក់ថា នៅពេលស្រុកបានឯករាជ្យប្តីគាត់នៅត្រួតត្រាតំបន់សៀមរាប ក្រោយមកទៅធ្វើការនៅខេត្តកំពង់ឆ្នាំង និងក្រុងភ្នំពេញ ។ មួយរយៈក្រោយមកស្រាប់តែឮគេចោទថា ប្តីខ្ញុំក្បត់ ហើយត្រូវគេចាប់ចងមុខអូសតាមឡានយកទៅសម្លាប់ ចោលមិនដឹងពីមូលហេតុច្បាស់លាស់ឡើយ ។ ចំណែកឯប្រពន្ធដើម និងកូនៗក៏ស្លាប់អស់ រី-ឯគាត់ និងកូន ក៏ទៅរស់នៅឯស្រុកកំណើតខាងម្តាយវិញ ។



លោកយាយ កណ្តុំ សក្តិ (រូបថតខ្មែរប៉ុស្តិ៍)



លោក ដាប ឈួន (រូបថតខ្មែរប៉ុស្តិ៍)

លោកយាយ កណ្តុំ សក្តិ បានរម្លឹកពីអតីតកាលថា ក្រោយមកគាត់ក៏ត្រូវគេចាប់ខ្លួនដាក់គុករយៈពេលប្រមាណមួយសប្តាហ៍ក៏លែងទៅវិញ ចាប់តាំងពីពេលនោះខ្សែជីវិតគាត់ក៏អណ្តែតត្រសែតគ្មានគោលដៅលុះដល់ឆ្នាំ 1984 គាត់ក៏សម្រេចចិត្តរៀបការប្តីមួយទៀត បានកូន2នាក់ ។

អ្នកស្រុកដែលរស់នៅខេត្តសៀមរាបម្នាក់ ឈ្មោះ ម៉ឺន មើ បានរម្លឹកថា គាត់បានឃើញគេចង ដាប ឈួន ចងមុខរួចអូសតាមឡានយកទៅសម្លាប់ដោយចោទថាក្បត់ជាតិ ប៉ុន្តែមិនដឹងពីមូលហេតុអ្វីឱ្យច្បាស់លាស់នោះទេ ។

លោក ម៉ឺន មើ បន្តថា កាលសម័យនោះ លោក ដាប ឈួន មានឈ្មោះល្បីទៅបង្កបង្កើតកសាងសាលារៀន មន្ទីរពេទ្យ ដាក់ឈ្មោះកូនស្រីគាត់ ដាប ឈួន មូលពេជ្រ ជាច្រើនកន្លែង ។

ទាក់ទងទៅនឹងការស្លាប់របស់ ដាប ឈួន នេះ ត្រូវបានលោក ប៊ុន ធឿន អ្នកស្រាវជ្រាវជាន់ខ្ពស់ផ្នែកប្រវត្តិសាស្ត្រនៅរាជបណ្ឌិតសភា បានឱ្យដឹងថា ដាប ឈួន ត្រូវបានគេចោទថា ក្បត់ជាតិនៅសម័យនោះចូលដៃជាមួយពួកសេរីប្រព្រឹត្តិអំពើពុករលួយជួញអាវុធខុសច្បាប់ប្រឆាំងនឹងរដ្ឋាភិបាល ។

គួរបញ្ជាក់ថា ក្រុមចលនាខ្មែរឥស្សរៈដែលតស៊ូប្រឆាំងនឹងបារាំងយ៉ាងស្រួចស្រាវដែលមិនព្រមបម្រើនយោបាយឱ្យពួកកុម្មុយនិស្តត្រូវបានគេចោទប្រកាន់ថាក្បត់ និងចាប់យកទៅសម្លាប់ដូចជា ដាប ឈួន, សម សារី ជាដើម ៕

